ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

## ឆ្នាំគម្រប់ពីរ

ខ្សែ ៩




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង់

គ្រិ. ឆ្នាំ ១៩២៩

ពុ. ស. ២៤៧១

អ្នកទទួលខុសត្រូវ ជុំ-ទៅ

# បញ្ជីរឿង

ទំព័រ

# អភិធម្មវិភាគ

ព្រះញាណបវរវិជ្ជា ឯម ចាន់ហ្វាង សាលាបរិយត្តិជាន់ខ្ពស់

## រៀបរៀងតពីខ្សែ ៥

(បប់)

២៣ ចតស្សោ វិភត្តិយោ វិភត្តិទាំងឡាយដែលព្រះសម្មាសម្ពុទ្ធ ទ្រង់សម្ដែងក្នុងគម្ពីរ ធម្មសង្គណិ នោះមាន ៤ យ៉ាងគឺ

១. សេចក្ដីដែលសម្ដែងចំណែកចែកនូវចិត្ត និង ចេតសិក ឈ្មោះថា ចិត្តវិភត្តិ បើនឹងហៅថា ចិត្តុប្បាទកណ្ឌ ដូច្នេះវិញក៏បាន ។

២. សេចក្ដីដែលសម្ដែងចំណែកចែកនូវរូបផ្សេងៗ ឈ្មោះថា រូបវិភត្តិ បើនឹងហៅថា រូបកណ្ឌ ដូច្នេះវិញក៏បាន ។

៣- សេចក្ដីដែលតម្កល់កាន់ទុកនូវបទមាតិកា ហើយសម្ដែងដោយសភាវធម៌ទាំងឡាយ មាន មូល និង ខន្ធ ជាដើមឲ្យជាគំនរ ឈ្មោះថា និក្ខេបរាសិវិភត្តិ បើនឹងហៅថា និក្ខេបកណ្ឌ ដូច្នេះវិញក៏បាន ។

៤- សេចក្ដីដែលសម្ដែងចំណែកចែករើឡើងនូវអត្ថ គឺ អដ្ឋកថា នៃព្រះវចនៈគឺបិដកបី ឈ្មោះថា អត្ថុទ្ធារវិភត្តិ បើនឹងហៅថា អត្ថុទ្ធារកណ្ឌ ដូច្នេះវិញក៏បាន ។

## ចិត្តវិភត្តិនោះសម្តែងដោយបទមាន ២ គឺ

១. បទសម្តែងសេចក្តីថា កុសលធម៌ ថាអកុសលធម៌ ថាអព្យាកតធម៌ យ៉ាងនេះជាដើមក្តី សម្តែងសេចក្តីថាធម៌ជាហេតុ ថាធម៌មិនមែនជាហេតុ យ៉ាងនេះជាដើមក្តី ឈ្មោះថាបទមាតិកា ។

២. បទដែលសម្តែងញែកចេញពីបទមាតិកា ឈ្មោះថាបទភាជនិយ ។

៦៤ និងអធិប្បាយក្នុង ចិត្តវិភត្តិ កុសលត្តិកៈ តទៅទៀត

ធម្មជាតិឯណាតែងប្រព្រឹត្ត តែងគិត តែងសន្សំនូវអារម្មណ៍ទាំងឡាយមានរូបារម្មណ៍ជាដើម ធម្មជាតិនោះឈ្មោះថាចិត្ត ។ នោះសម្តែងដោយប្រភេទមានប្រការ ៤ គឺ :

១. ចិត្តដែលត្រាច់ទៅរឿយ ៗ ក្នុងកាមភពទាំង ១១ ជាន់ ឈ្មោះថាកាមាវចរចិត្ត ។

២. ចិត្តដែលត្រាច់ទៅរឿយ ៗ ក្នុងរូបភពឈ្មោះថា រូបាវចរចិត្ត ។

៣. ចិត្តដែលត្រាច់ទៅរឿយ ៗ ក្នុងអរូបភពឈ្មោះថា អរូបាវចរចិត្ត ។

៤. ចិត្តដែលឆ្លងចាកលោក បានខាងព្រះអរិយបុគ្គល ដែលលោកមានចិត្តផុតពីលោកហើយ ឈ្មោះថាលោកុត្តរចិត្ត ។

៦៥ កាមាវចរចិត្តនោះមាន ៥៤ ចាត់ជា ៣ ពួកគឺ

១. ចិត្តតែងប្រព្រឹត្ត តែងគិត តែងសន្សំនូវអនិដ្ឋារម្មណ៍គឺបណ្ឌិត

មិនគប្បីប្រាថ្នា ចាត់ជាចិត្តជាបាបដ៏លាមក សម្រាប់នាំសត្វឲ្យសោយទុក្ខ ឈ្មោះថាអកុសលចិត្តពួកមួយមាន ១២ ។

២. ចិត្តដែលប្រព្រឹត្ត ដែលគិត ដែលសន្សំនូវអារម្មណ៍ ពុំអាចដើម្បីញុំាងគុណវិសេសមានបឋមជ្ឈានជាដើម ឲ្យកើតឡើងបាន ឈ្មោះថាអហេតុកចិត្តពួក ១ មាន ១៨ ។

៣. ចិត្តដែលប្រព្រឹត្ត ដែលគិត ដែលសន្សំនូវឥដ្ឋារម្មណ៍ គឺបណ្ឌិតគប្បីប្រាថ្នា ចាត់ជាចិត្តជាបុណ្យដ៏ប្រសើរ សម្រាប់នាំសត្វឲ្យសោយសុខ ឈ្មោះថា សហេតុកកាមាវចរចិត្ត ពួក១ មាន ២៤ ។

## ២៦ អកុសលចិត្ត ១២ នោះបែកចេញជាមូល មាន ៣ គឺ (លោភមូល)

១. លោភមូល ចិត្តដែលប្រព្រឹត្ត ដែលគិត ដែលសន្សំនូវអារម្មណ៍ ប្រឡំព្រមដោយសេចក្តីលោភច្រើន ឈ្មោះថាលោភមូលមាន ៨ ។

២. ទោសមូល ចិត្តប្រព្រឹត្ត ដែលគិត ដែលសន្សំនូវអារម្មណ៍ ប្រឡំដោយទោមនស្ស គឺសេចក្តីអាក់អន់ចិត្តខឹងប្រទូស្ត ឈ្មោះថាទោសមូលមាន ២ ។

៣. មោហមូល ចិត្តដែលប្រព្រឹត្ត ដែលគិត ដែលសន្សំនូវអារម្មណ៍ ប្រឡំព្រមដោយសេចក្តីវង្វេងងងឹតសូន្យសោះ ឈ្មោះថាមោហ-

មូលមាន ២ ៗ

## លោភមូលមាន ៨ នោះគឺ

១ ចិត្តកើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ គឺរូប ១ សំឡេង ១ ក្លិន ១ រស ១ សម្ផស្ស ១ ធម្មៈ ១ អារម្មណ៍ឯណាទីមួយ ហើយត្រេកអរ គិតខុស ឃើញខុសប្រកាន់មាំ ប្រព្រឹត្តធ្វើបាបតាមអំពើចិត្តខ្លួន ៗ

២- ចិត្តកើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះអារម្មណ៍ឯណាទីមួយ ហើយត្រេកអរ គិតខុស ឃើញខុសប្រកាន់មាំ ប្រព្រឹត្តធ្វើបាប ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ៗ

៣- ចិត្តកើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយត្រេកអរគិតខុស ឃើញខុសប្រកាន់មាំក៏ទេ តែប្រព្រឹត្តធ្វើបាប តាមអំពើចិត្តខ្លួន ៗ

៤- ចិត្តកើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយហើយត្រេកអរគិតខុស ឃើញខុសប្រកាន់មាំក៏ទេ តែប្រព្រឹត្តធ្វើបាប ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ៗ

៥- ចិត្តកើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយនឹងនៅព្រងើយជាកណ្តាល គិតខុស ឃើញខុសប្រកាន់មាំ ប្រព្រឹត្តធ្វើបាប តាមអំពើចិត្តខ្លួន ៗ

៦- ចិត្តកើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះអារម្មណ៍ឯ

ណាមួយ ហើយនឹងនៅព្រងើយជាកណ្ដាល គិតខុសឃើញខុសប្រ-
កាន់មាំ ប្រព្រឹត្តធ្វើបាប ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

៧- ចិត្តបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយនឹងនៅព្រងើយជាកណ្ដាល គិតខុសឃើញខុសប្រកាន់មាំក៏ទេ តែប្រព្រឹត្តធ្វើបាប តាមអំពើចិត្តខ្លួន ។

៨- ចិត្តបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយនឹងនៅព្រងើយជាកណ្ដាល គិតខុសឃើញខុសប្រកាន់មាំក៏ទេ តែប្រព្រឹត្តធ្វើបាប ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

## ទោសមូល ២ នោះគឺ

១- ចិត្តបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ អាក់អន់ក្ដៅក្រហាយចិត្ត ចង្អៀតចង្អល់ចិត្ត ប្រព្រឹត្តធ្វើបាប តាមអំពើចិត្តខ្លួន ។

២- ចិត្តបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ អាក់អន់ក្ដៅក្រហាយចិត្ត ចង្អៀតចង្អល់ចិត្ត ប្រព្រឹត្តធ្វើបាប ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

## មោហមូល ២ នោះ គឺ

១- ចិត្តបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយនឹងនៅព្រងើយជាកណ្ដាល ប្រកបដោយសេចក្ដីសន្ទិះ-

សន្ស័យផ្សេង ១ មានសន្ស័យក្នុងគុណព្រះពុទ្ធជាដើម ។

២- ចិត្តបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណានីមួយ ហើយនឹងទៅព្រងើយជាកណ្តាល ប្រកបដោយសេចក្តីរាយមាយ ឬថាហុយឡើងដូចផ្សែង ។

(ចប់អកុសលចិត្ត ១២ តែប៉ុណ្ណេះ)

# អហេតុកចិត្ត មាន ១៨ នោះបែកចេញជា ៣ យ៉ាងគឺ

១- អកុសលវិបាកចិត្ត ចិត្តដែលបង្កើតអំពីផលនៃអកុសល ឬថាបង្កើតអំពីដួរស្នាមរបស់អកុសល ឈ្មោះថាអកុសលវិបាកចិត្តមាន ៧។

២- កុសលវិបាកចិត្ត ចិត្តដែលបង្កើតអំពីផលនៃកុសលឬថាបង្កើតអំពីដួរស្នាមរបស់កុសល ឈ្មោះថាកុសលវិបាកចិត្តមាន ៨ ។

៣- កិរិយាចិត្ត ចិត្តដែលបង្កើតឡើង គ្រាន់តែជាហេតុ ឈ្មោះថាកិរិយាចិត្តមាន ៣ ។

# អកុសលវិបាកចិត្តមាន ៧ នោះគឺ

១- ចក្ខុវិញ្ញាណ លាយដោយឧបេក្ខា ព្រងើយជាកណ្តាលក្នុងអនិដ្ឋារម្មណ៍ ជាផលបង្កើតអំពីអកុសលចិត្ត ។

២- សោតវិញ្ញាណ លាយដោយឧបេក្ខា ព្រងើយជាកណ្តាលក្នុងអនិដ្ឋារម្មណ៍ ជាផលបង្កើតអំពីអកុសលចិត្ត ។

៣- ឃានវិញ្ញាណ លាយដោយឧបេក្ខា ព្រងើយជាកណ្តាលក្នុងអនិដ្ឋារម្មណ៍ ជាផលបង្កើតអំពីអកុសលចិត្ត ។

៤. ជិវ្ហាវិញ្ញាណ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាល ក្នុងអនិដ្ឋារម្មណ៍ ជាផលបង្កើតអំពីអកុសលចិត្ត ។

៥. កាយវិញ្ញាណ លាយដោយសេចក្តីទុក្ខលំបាក ជាផលបង្កើតអំពីអកុសលចិត្ត ។

៦. វិថីចិត្ត ទទួលយកនូវអនិដ្ឋារម្មណ៍ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាល ជាផលកើតអំពីអកុសលចិត្ត ។

៧. វិថីចិត្ត ត្រិះរិះនូវអនិដ្ឋារម្មណ៍ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាល ជាផលបង្កើតអំពីអកុសលចិត្ត ។

## កុសលវិបាកចិត្ត ៨ នោះគឺ

១. ចក្ខុវិញ្ញាណ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាលក្នុងឥដ្ឋារម្មណ៍ ជាផលបង្កើតអំពីកុសលចិត្ត ។

២. សោតវិញ្ញាណ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាលក្នុងឥដ្ឋារម្មណ៍ ជាផលបង្កើតអំពីកុសលចិត្ត ។

៣. ឃានវិញ្ញាណ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាលក្នុងឥដ្ឋារម្មណ៍ ជាផលបង្កើតអំពីកុសលចិត្ត ។

៤. ជិវ្ហាវិញ្ញាណ លាយដោយឧបេក្ខា ព្រមហើយជាកណ្តាលក្នុងឥដ្ឋារម្មណ៍ ជាផលបង្កើតអំពីកុសលចិត្ត ។

៥. កាយវិញ្ញាណ លាយដោយសេចក្តីសុខសប្បាយ ជាផលបង្កើតអំពីកុសលចិត្ត ។

៦- វិថីចិត្ត ទទួលយកនូវឥដ្ឋារម្មណ៍ លាយដោយឧបេក្ខា ព្រងើយជាកណ្ដាល ជាផលបង្កើតអំពីកុសលចិត្ត ។

៧- វិថីចិត្ត ត្រិះរិះនូវឥដ្ឋារម្មណ៍ លាយដោយសោមនស្ស គឺសេចក្ដីត្រេកអររីករាយ ជាផលបង្កើតអំពីកុសលចិត្ត ។

៨- វិថីចិត្ត ត្រិះរិះនូវឥដ្ឋារម្មណ៍ លាយដោយឧបេក្ខា ព្រងើយជាកណ្ដាល ជាផលបង្កើតអំពីកុសលចិត្ត ។

## កិរិយាចិត្ត ៣ នោះគឺ

១- វិថីចិត្តសម្រាប់ពិចារណា ប្រើប្រាស់ក្នុងទ្វារទាំង៥ លាយដោយឧបេក្ខា ព្រងើយជាកណ្ដាល ។

២- វិថីចិត្តសម្រាប់ពិចារណា ប្រើប្រាស់ក្នុងមនោទ្វារ លាយដោយឧបេក្ខា ព្រងើយជាកណ្ដាល ។

៣- ចិត្តជាហេតុញុំាងសេចក្ដីញញឹមឲ្យបង្កើតឡើង លាយដោយសោមនស្ស សេចក្ដីរីករាយ ជារបស់អរិយបុគ្គល ។

(ចប់អហេតុកចិត្ត ១៨ តែប៉ុណ្ណេះ)

## សហេតុកាមាវចរចិត្ត ២៤ នោះបែកចេញជា ៣ យ៉ាងទៀតគឺ

១- ចិត្តតែងប្រព្រឹត្ត តែងគិត តែងសន្សំនូវអារម្មណ៍ ប្រកបដោយហេតុជាទីញុំាងកុសល ឲ្យបង្កើតឡើងច្រើន ឈ្មោះថាកុសលចិត្តមាន ៨ (បើនឹងហៅថាមហាកុសលចិត្តដូច្នេះវិញក៏បាន) ។

២- ចិត្តដែលប្រព្រឹត្ត ដែលគិត ដែលសន្សំនូវអារម្មណ៍ ប្រកបដោយហេតុជាផលបង្កើតអំពីកុសលចិត្តច្រើន ឈ្មោះថាវិបាកចិត្តមាន ៨ (បើនឹងហៅថាមហាវិបាកចិត្តដូច្នេះវិញក៏បាន) ។

៣- ចិត្តជាហេតុសម្រាប់ផ្សាយដនវិថី ឲ្យទទួលនូវអារម្មណ៍ច្រើន ឈ្មោះកិរិយាចិត្តមាន ៨ (បើនឹងហៅថាមហាកិរិយាចិត្តដូច្នេះវិញក៏បាន)។

ដែលនឹងសម្តែងតទៅនេះ ត្រូវហៅតាមន័យនេះ ។

## អកុសលចិត្ត ៨ នោះគឺ

១- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ គឺរូប ១ សម្លេង ១ ក្លិន ១ រស ១ សម្ផស្ស ១ ធម្ម ១ អារម្មណ៍ឯណាទីមួយ ហើយរែកពយពិចារណាឃើញប្រពៃប្រកាន់មាំ ប្រព្រឹត្តធ្វើបុណ្យ តាមអំពើចិត្តខ្លួន ។

២- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរែកពយ ពិចារណាឃើញប្រពៃប្រកាន់មាំ ប្រព្រឹត្តធ្វើបុណ្យ ប្រកបតាមគេដឹកនាំ ឬបេតសិកជាស់តឿន ។

៣- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ឯណាទីមួយ ហើយរែកពយ ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែជាប្រព្រឹត្តធ្វើបុណ្យតាមអំពើចិត្តខ្លួន ។

៤- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរែកពយ ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែប្រព្រឹត្តធ្វើបុណ្យប្រកបតាមគេដឹកនាំ ឬបេតសិកជាស់តឿន ។

៥- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំ ប្រព្រឹត្តធ្វើបុណ្យ តាមអំពើចិត្តខ្លួន ។

៦- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំ ប្រព្រឹត្តធ្វើបុណ្យ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

៧- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែជាប្រព្រឹត្តធ្វើបុណ្យ តាមអំពើចិត្តខ្លួន ។

៨- ចិត្តបង្កើតឡើងកាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែប្រព្រឹត្តធ្វើបុណ្យ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

## មហាវិបាកចិត្ត ៨ នោះគឺ

១- ចិត្តជាផលគឺជាជាដូរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយកែកាយពិចារណាឃើញប្រពៃប្រកាន់មាំ បង្កើតជានិមិត្តសម្រាប់កាន់យកនូវភពថ្មីនឹងតាក់តែងនូវបដិសន្ធិ តាមអំពើចិត្តខ្លួន ។

២- ចិត្តជាផលគឺជាជាដូរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាមួយ ហើយកែកាយ ពិចារណា

ឃើញប្រពៃប្រកាន់មាំ បង្កើតជានិមិត្តសម្រាប់ប្រកាន់យកនូវភពថ្មី នឹងតាក់តែងបដិសន្ធិ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

៣- ចិត្តជាផល គឺថាជាដួរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរើកពយ ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែបង្កើតជានិមិត្តសម្រាប់កាន់យកនូវភពថ្មីនឹងតាក់តែងនូវបដិសន្ធិ តាមអំពើចិត្តខ្លួន ។

៤- ចិត្តជាផល គឺថាជាដួរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរើកពយពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែបង្កើតជានិមិត្តសម្រាប់ប្រកាន់យកនូវភពថ្មី នឹងតាក់តែងនូវបដិសន្ធិ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

៥. ចិត្តជាផល គឺថាជាដួរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្ដាល ពិចារណាឃើញប្រពៃប្រកាន់មាំ បង្កើតជានិមិត្តសម្រាប់កាន់យកនូវភពថ្មី នឹងតាក់តែងនូវបដិសន្ធិ តាមអំពើចិត្តខ្លួន ។

៦- ចិត្តជាផល គឺថាជាដួរស្នាមកុសលចិត្ត កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្ដាល ពិចារណាឃើញប្រពៃប្រកាន់មាំ នឹងតាក់តែងនូវបដិសន្ធិ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

៧- ចិត្តជាផល គឺថាជាដួរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍

តាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែបង្កើតជានិម្មិតសម្រាប់កាន់យកនូវភពថ្មី នឹងតាក់តែងនូវបដិសន្ធិ តាមអំពើចិត្តខ្លួន ។

៨- ចិត្តជាផល គឺជាជួរស្នាមរបស់កុសលចិត្ត កាន់យកនូវអារម្មណ៍តាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ តែបង្កើតជានិម្មិតសម្រាប់កាន់យកនូវភពថ្មី នឹងតាក់តែងនូវបដិសន្ធិ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

## មហាកិរិយាចិត្ត ៨ នោះគឺ

១- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍តាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរីករាយពិចារណាឃើញប្រពៃប្រកាន់មាំសម្រាប់ផ្សាយជវនវិថីឲ្យទទួលនូវអារម្មណ៍ តាមអំពើចិត្តខ្លួន ។

២- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍តាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរីករាយពិចារណាឃើញប្រពៃប្រកាន់មាំសម្រាប់ផ្សាយជវនវិថីឲ្យទទួលនូវអារម្មណ៍ ប្រកបតាមគេដឹកនាំ ឬចេតសិកដាស់តឿន ។

៣- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍តាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរីករាយពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ គ្រាន់តែផ្សាយជវនវិថីឲ្យទទួលនូវអារម្មណ៍តាមអំពើចិត្តខ្លួន ។

៤- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍

ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយរកពយពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ គ្រាន់តែផ្សាយដវនវិថីឲ្យទទួលនូវអារម្មណ៍ ប្រកបតាមគេដឹកនាំ ឬបេតសិកដាស់តឿន ។

៥- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំ សម្រាប់ផ្សាយដវនវិថីឲ្យទទួលនូវអារម្មណ៍ តាមអំពើចិត្តខ្លួន ។

៦- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំ សម្រាប់ផ្សាយដវនវិថីឲ្យទទួលនូវអារម្មណ៍ ប្រកបតាមគេដឹកនាំ ឬបេតសិកដាស់តឿន ។

៧- ចិត្តជាហេតុនៃកុសលវិបាកបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ គ្រាន់តែផ្សាយដវនវិថីឲ្យទទួលនូវអារម្មណ៍ តាមអំពើចិត្តខ្លួន ។

៨- ចិត្តជាហេតុបង្កើតឡើង កាន់យកនូវអារម្មណ៍ទាំង ៦ នោះ អារម្មណ៍ឯណាទីមួយ ហើយព្រងើយជាកណ្តាល ពិចារណាឃើញប្រពៃប្រកាន់មាំក៏ទេ គ្រាន់តែផ្សាយដវនវិថីឲ្យទទួលនូវអារម្មណ៍ ប្រកបតាមគេដឹកនាំ ឬបេតសិកដាស់តឿន ។

អកុសលចិត្ត ១២ អហេតុកចិត្ត ១៨ សហេតុកាមាវចរចិត្ត ២៤ ត្រូវជា ៥៤ ។ (ចប់ដោយសង្ខេបតែប៉ុណ្ណោះ)

## រូបាវចរចិត្តនោះមាន ១៥ បែកចេញជា ៣ យ៉ាងគឺ

១- ចិត្តជារូបាវចរកុសលនៃព្រះយោគាវចរ ដែលបានពិចារណាឃើញនូវទោសក្នុងកាមគុណ ចម្រើននូវសមថកម្មដ្ឋានមានបឋវីកសិណជាដើម ហើយញុំាងឈានឲ្យកើតឡើង ឈ្មោះថារូបាវចរចិត្តមាន ៥ ។

២- ចិត្តជាផលនៃរូបាវចរកុសល បង្កើតជានិមិត្តសម្រាប់កាន់យកនូវភពថ្មី នឹងតាក់តែងនូវបដិសន្ធិ ឈ្មោះថារូបាវចរវិបាកចិត្ត ៥ ។

៣- ចិត្តជាហេតុនៃរូបាវចរវិបាក សម្រាប់ផ្សាយជវនវិថីឲ្យទទួលនូវអារម្មណ៍ ឈ្មោះថារូបាវចរកិរិយាចិត្តមាន ៥ ។

## រូបាវចរកុសលចិត្ត ៥ នោះគឺ

១- ចិត្តជារូបាវចរកុសល ស្ថិតនៅក្នុងបឋមជ្ឈាន មាននីវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៥ គឺ វិតក្កៈ សេចក្ដីត្រិះរិះនូវអារម្មណ៍ ១ វិចារ សេចក្ដីពិចារណានូវអារម្មណ៍ ១ បីតិ សេចក្ដីផឹកនូវអារម្មណ៍ ឆ្អែតកាយឆ្អែតចិត្ត ១ សុខ សេចក្ដីសោយអារម្មណ៍ស្រួលកាយស្រួលចិត្ត ១ ឯកគ្គតា ការនៃចិត្តនឹងក្នុងអារម្មណ៍តែមួយ ១ ។

២- ចិត្តជារូបាវចរកុសល ស្ថិតនូវក្នុងទុតិយជ្ឈានមាននីវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៤ គឺវិចារ ១ បីតិ ១ សុខ ១ ឯកគ្គតា ១

៣- ចិត្តជារូបាវចរកុសល ស្ថិតនៅក្នុងតតិយជ្ឈានមាននីវរណធម៌ជា

សត្រូវ ប្រកបដោយអង្គ ៣ គឺ បីតិ ១ សុខ ១ ឯកគ្គតា ១ ។

៤- ចិត្តជារូបាវចរកុសល ស្ថិតនៅក្នុងចតុត្ថជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ២ គឺ សុខ ១ ឯកគ្គតា ១ ។

៥- ចិត្តជារូបាវចរកុសលស្ថិត នៅក្នុងបញ្ចមជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ២ គឺ ឧបេក្ខា ចេតសិកធម៌ សោយអារម្មណ៍ព្រងើយជាកណ្ដាល ១ ឯកគ្គតា ១ ។

## រូបាវចរវិបាកចិត្ត ៥ នោះគឺ

១- ចិត្តជារូបាវចរវិបាក ស្ថិតនៅក្នុងបឋមជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៥ គឺ វិតក្កៈ ១ វិចារ ១ បីតិ ១ សុខ ១ ឯកគ្គតា ១ ។

២- ចិត្តជារូបាវចរវិបាក ស្ថិតនៅក្នុងទុតិយជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៤ គឺ វិចារ ១ បីតិ ១ សុខ ១ ឯកគ្គតា ១

៣- ចិត្តជារូបាវចរវិបាក ស្ថិតនៅក្នុងតតិយជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៣ គឺ បីតិ ១ សុខ ១ ឯកគ្គតា ១ ។

៤- ចិត្តជារូបាវចរវិបាក ស្ថិតនៅក្នុងចតុត្ថជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ២ គឺ សុខ ១ ឯកគ្គតា ១ ។

៥- ចិត្តជារូបាវចរវិបាក ស្ថិតនៅក្នុងបញ្ចមជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ២ គឺ ឧបេក្ខា ១ ឯកគ្គតា ១ ។

# រូបាវចរកិរិយាចិត្ត ៥ នោះគឺ

១- ចិត្តជាហេតុនៃរូបាវចរវិបាក ស្ថិតនៅក្នុងបឋមជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៥ គឺ វិតក្ក ១ វិចារ ១ បីតិ ១ សុខ ១ ឯកគ្គតា ១ ។

២- ចិត្តជាហេតុនៃរូបាវចរវិបាក ស្ថិតនៅក្នុងទុតិយជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៤ គឺ វិចារ ១ បីតិ ១ សុខ ១ ឯកគ្គតា ១ ។

៣- ចិត្តជាហេតុនៃរូបាវចរវិបាក ស្ថិតនៅក្នុងតតិយជ្ឈាន មាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ៣ គឺ បីតិ ១ សុខ ១ ឯកគ្គតា ១ ។

៤- ចិត្តជាហេតុនៃរូបាវចរវិបាក ស្ថិតនៅក្នុងចតុត្ថជ្ឈានមាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ២ គឺ សុខ ១ ឯកគ្គតា ១ ។

៥- ចិត្តជាហេតុនៃរូបាវចរវិបាក ស្ថិតនៅក្នុងបញ្ចមជ្ឈានមាននិវរណធម៌ជាសត្រូវ ប្រកបដោយអង្គ ២ គឺ ឧបេក្ខា ១ ឯកគ្គតា ១ ។

(ចប់រូបាវចរចិត្ត ១៥ តែប៉ុណ្ណោះ)



# អំពីដំណើរទៅស្រុកកូសាំងស៊ីន

## ចំពោះខែត្រដែលមានវត្តលោកសង្ឃខ្មែរ

ព្រះគ្រូសង្ឃវិជ្ជា ហ.តាត

អាចារ្យបង្រៀនភាសាសំស្ក្រឹត នៅសាលាបាលីជាន់ខ្ពស់អធិប្បាយ

(ក)

### ដំណើរក្នុងខែត្រកង ប៊ី ថ្ងៃ ៣១ ខែយ៉ាំងវីយេរឆ្នាំ ១៩២៨

ដំណើរដែលចេញទៅមើលវត្តក្នុងខែត្រកង ប៊ីនេះ ប្លែកជាងខែត្រឯទៀតៗ មុនដំបូងចេញឆ្ពោះទៅវត្តកំពង់ស្ពានក្នុងស្រុកកៅកេ ដំណើរដែលទៅនោះដោយរថយន្តពីរ គឺខ្លួនខ្ញុំនឹងឈ្មោះ ដី ទៅដោយរថយន្ត ១ ចេញទៅមុនពីម៉ោង ៦ ព្រឹក លោកឡាដមីនិស្ត្រាទ័រ និងចាងហ្វាងព្រះរាជបណ្ណាល័យទៅដោយរថយន្ត ១ ចេញទៅជាខាងក្រោយ ។ ខ្លួនខ្ញុំបានដល់ទៅវត្តកំពង់ស្ពានមុន នៅវេលាម៉ោង ៨ និង ២៩ មីនុត ក៏បានឃើញអស់ទាំងបណ្តាមន្ត្រីយួន និងឧបាសកស្រី ប្រុស ជាតិខ្មែរ លាយជាតិយួន មិនខ្វះប្រហែល ៤០០ នាក់ មួយអន្លើដោយលោកសង្ឃ ២០ វត្តចំនួនប្រហែល ១២០ អង្គ មកជួបជុំចាំនៅទីវត្ត កំពង់ស្ពាននោះទាំងអស់គ្នា លុះចុះពីរថយន្តចូលទៅដល់ក្នុងទី បណ្តាលោកសង្ឃនិងឧបាសកមកឈរចាំទទួលទាំងអស់គ្នា ព្រមទាំងលេងភ្លេងសៀមទទួល

ផង ចំណែកលោកសង្ឃឃើញពាក់ចីពរស្ពាយឆៀងដូចគ្នាទាំងអស់ជាការរៀបរយល្អមើល លុះឡើងទៅដល់លើសាលា ដែលជាទីគេរៀបចំទទួលហើយ ទើបលោកសង្ឃនិងឧបាសកទាំងអស់ ក៏បានឡើងទៅជួបជុំជាមួយគ្នា ខ្លួនខ្ញុំក៏បានប្រាប់ឮសួរវត្តឯទៀត ៗ ព្រោះតាងហ្វានព្រះរាជបណ្ណាល័យបានផ្ដាំថា បើដល់ទៅមុខឲ្យធ្វើការមុនទៅចុះ ព្រោះលោកសង្ឃមានច្រើនវត្តក្រែងធ្វើការមិនទាន់ពេលវេលា លុះដល់វេលាម៉ោងជាង ៩ ព្រឹកទើបតាងហ្វានព្រះរាជបណ្ណាល័យ និងលោកឡាជមីនីស្ត្រា-ទ័រ អញ្ជើញទៅដល់ វេលានោះអស់ពួកមន្ត្រីយួនជាច្រើននាក់ មានលោកចៅហ្វាយស្រុកយួនជាដើម និងបណ្ដារាស្ត្រទាំងឡាយក៏ចុះមកព្រមទាំងឲ្យលេងភ្លេងសៀមទទួល លុះអញ្ជើញឡើងទៅដល់លើសាលា ក៏បណ្ដាលោកសង្ឃទាំងអស់ ក្រោកឈរឡើងគ្រប់អង្គ ដើម្បីទទួលគំនាប់ដោយសេចក្ដីគួរសម ទើបលោក ឡាជមីនីស្ត្រាទ័រ និង តាងហ្វានព្រះរាជបណ្ណាល័យ និងចៅហ្វាយស្រុកយួនអង្គុយលើកៅអី ចំណែកមន្ត្រីយួនឯទៀត និងបណ្ដារាស្ត្រ ប្រុសស្រីទាំងអស់ ខ្លះអង្គុយរាប ខ្លះឈរ រីឯលោកសង្ឃទាំងអស់ គេនឹងឲ្យនៅតែឈរដូចនោះក៏មិនសមគួរ ទើបគេឲ្យអង្គុយរាបគ្រប់អង្គទៅ (របៀបដែលអ្នកធំជាគ្រហស្ថអង្គុយលើកៅអី ហើយលោកសង្ឃអង្គុយរាបនេះ យើងជាអ្នកកាន់ពុទ្ធសាសនា មើល

ទៅឃើញថាពុំសមគួរឡើយ ទោះបីលោកសង្ឃអង្គុយលើកន្ទេលក្រហមក្តី ក៏នៅតែពុំសមគួរ ព្រោះទីអាសនៈតាបតេក ប៉ុន្តែមិនដឹងធ្វើដូចម្តេច គេរៀបតាក់តែងស្រេចហើយ តែតាមដែលយើងយល់ថា ប្រសិនបើមានកៅអីច្រើន ហើយរៀបដាក់ឲ្យលោកសង្ឃអង្គុយលើកៅអីទាំងអស់ ឬពុំនោះរៀបទីអង្គុយឲ្យខ្ពស់បន្តិចឡើង នេះទើបឃើញថាគួរដល់ភ្នែកអ្នកព្រះពុទ្ធសាសនា ដែលក្រឡេកមើលទៅ) ។

លុះជួបជុំស្រេចហើយ ទើបតាងហ្វាងព្រះរាជបណ្ណាល័យបានសួរពីរឿងគិតបង្កើតឲ្យមានសាលា រៀនសូត្រខាងខ្មែរ លោកសង្ឃទាំងអស់ក៏ឆ្លើយត្រូវគ្នាថា ត្រូវការចង់បានឲ្យមានសាលារៀន ឲ្យមានគ្រូបង្រៀនខាងខ្មែរ ព្រមទាំងខាងបារាំងខ្លះផង រួចហើយបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ពដល់លោកអធិការទាំង ២១ វត្ត ដែលមកជួបជុំក្នុងទីនោះ គឺលោកវត្តកំពង់ស្ពាន វត្តពោធិ៍សិរី វត្តតាធៀវ វត្តពោធិ៍លាំងជ័យ វត្តកណ្តាល វត្តសម្បុណ៌ វត្តពោធិ៍កិម្យរង្សី វត្តសណ្តឹង វត្តបងបត់ចាស់ វត្តបងបត់បុងខ្សាប់ វត្តបងបត់កំពង់ពោធិ៍ វត្តតាដេរ វត្តឫស្សីស្រុក វត្តមេពាំង វត្តបាក់ខ្នា វត្តបុងព្រះលាន វត្តតាគុត វត្តខ្នាប ថ្មរ វត្តអូរល្មប វត្តម្រុំស្រុក ។ លុះប្រគេនរួចស្រេចហើយ ទើបតាងហ្វាងព្រះរាជបណ្ណាល័យ ឲ្យខ្ញុំនិយាយពន្យល់ក្នុងទីប្រជុំនោះ អំពីរឿង

ព្រះពុទ្ធសាសនា និងសាលាបាលីហើយនិងព្រះរាជបណ្ណាល័យដែលរាជការបង្កើតឲ្យមានក្នុងស្រុកខ្មែរ ជាហេតុនឹងឲ្យបានព្រះពុទ្ធសាសនាស្ថិតនៅដោយមាំមួន ខ្ញុំក៏បាននិយាយពន្យល់អស់ចំនួន ៣០ មិនុត ក៏ដល់ពេលនឹងធ្វើភត្តកិច្ច ទើបរំសាយទីប្រជុំនោះ ១ លើក ។ លោកឡាជមីនីស្ត្រាទ័រ និងចាងហ្វាងព្រះរាជបណ្ណាល័យអញ្ជើញទៅទទួលភោជនាហារឯផ្ទះមន្ត្រីយួន ដែលជាធំក្នុងស្រុកនោះ លោកសង្ឃនិងឧបាសកទាំងអស់ក៏សម្រេចភត្តកិច្ចតាមការក្នុងវត្តនោះ លុះរួចពេលភត្តកិច្ចហើយព្រះសង្ឃនិងឧបាសក ឧបាសិកា ទាំងអស់ក៏ឡើងមកប្រជុំព្រមគ្នាក្នុងទីសាលាដដែលនោះម្តងទៀត ដោយមានប្រាថ្នាចង់ស្តាប់អត្ថរសធម៌ដែលជាគុណនៃព្រះពុទ្ធសាសនា អំពីសំណាក់ ខ្ញុំ ។ ក៏បានទៅអធិប្បាយអំពីគុណព្រះពុទ្ធសាសនាក្នុងទីប្រជុំនោះតាមសេចក្តីត្រូវការរបស់ព្រះសង្ឃនិងឧបាសកឧបាសិកាចំនួន ៤០ មិនុត ក៏បញ្ចប់សេចក្តីអធិប្បាយនោះទៅ ។ ចំណែកលោកឡាជមីនីស្ត្រាទ័រ និងចាងហ្វាងព្រះរាជបណ្ណាល័យក៏បង្អង់រង់ចាំដរាបដល់ចប់ លុះចប់ហើយក៏រៀបដំណើរនឹងត្រឡប់ចេញអំពីនោះក្នុងវេលាម៉ោង ១ រសៀល លោកសង្ឃនិងឧបាសកទាំងអស់ ក៏ចុះជូនដំណើរដល់មាត់ទ្វារក្រៅវត្ត ទើបលោកឡាជមីនីស្ត្រាទ័រ និងចាងហ្វាងព្រះរាជបណ្ណាល័យ ក៏ងាកបែរមកកាន់ប្រជុំមនុស្សទាំងអស់ហើយនិយាយ

ថា យើងសង្ឃឹមថាអ្នកទាំងអស់គ្នា នឹងបានប្រតិបត្តិតាមព្រះពុទ្ធសាសនា
តាមគន្លង ដែលលោកគ្រូសង្ឃរាជា តាត បានអធិប្បាយពន្យល់អម្បាញ់
មិញនេះមិនខាន ហើយឲ្យពរស័ព្ទសាធុការរួចលាត្រឡប់ចេញពីនោះមក
វិញ ឆ្ពោះទៅកាន់ទីប្រជុំ ១ ទៀត នៅវត្តទ្រទំសេក ក្នុងខ័ណ្ឌ តាខ្មៅ
ក្នុងទីរួមខេត្ត កង ចឺ នេះដែរ កាលដែលចេញពីនោះមកមិនឆ្ងាយប៉ុន្មាន
ក៏ដល់មកកំពង់ចម្លងរថយន្ត ហើយចុះពីរថយន្តឡើងទៅលើកាណូតដែល
មន្ត្រីយួនម្នាក់រៀបចម្រុងទទួលជូនដំណើរទៅឯវត្តទ្រទំសេក ព្រោះវត្តនេះ
នៅក្បែរមាត់ស្ទឹង ឥតមានផ្លូវទឹងទៅបានដោយរថយន្តកាណូតនោះចេញ
ទៅមិនឆ្ងាយប៉ុន្មាន ក៏បានដល់ទៅវត្ត ទ្រទំសេក កាលដែលទៅដល់បាន
ឃើញមន្ត្រីយួនធំតូចព្រមទាំងព្រះសង្ឃ និងឧបាសកឧបាសិកាចុះមក
ទទួលដល់កំពង់ទឹក លុះឡើងដល់ទៅទីកុដិដែលលោករៀបទទួល ក៏
ឃើញជួបជុំព្រះសង្ឃ ៤ វត្ត គឺវត្តទ្រទំសេក វត្តសាលវៃឧទ្យាន វត្ត
ស្វាយ វត្តដូនល្អ វត្តតាឆាយ រួមលោកសង្ឃទាំងអស់ចំនួន ២០ អង្គ
ព្រមទាំងឧបាសកប្រហែល ១៧០ នាក់ ទើបចាងហ្វាងព្រះរាជបណ្ណាល័យ
បានឲ្យសួរជួបវត្តឯទៀត ហើយបានប្រគេនសៀវភៅនិងរូបថតពុម្ពគ្រប់
វត្តរួចខ្ញុំក៏បាននិយាយពន្យល់ពីផ្លូវព្រះពុទ្ធសាសនា ឲ្យព្រះសង្ឃនិងឧបា-
សក ឧបាសិកាទាំងអស់គ្នា បានស្តាប់ចំនួន ៣០ មីនុតក៏ដល់ពេល

ល្មមនឹងត្រឡប់មកវិញ (ក្នុងទីប្រជុំនេះឥតមាននិយាយអ្វីច្រើនទេ) លុះត្រឡប់មកវិញ តាមកាណូតតែបន្តិចក៏ដល់មកកន្លែងឡើងទៅកាន់រថយន្តដែលមករង់នៅចាំ ហើយចេញពីទីនោះ ដោយរថយន្តឆ្ពោះទៅឯ កងថីវិញ ដល់ម៉ោង ៦ ល្ងាច ដល់ទៅកងថី ដែលជាទីសំណាក់ ។

ថ្ងៃ ១ ខែហ្វ្រីយេឆ្នាំ ១៩២៨

វេលាម៉ោង ៧ ព្រឹកចេញទៅវត្ត អញ្ញិក ក្នុងឡានញីឡាំង ក្នុង-ឱញកៀក លោកឡាជមីទីស្ត្រាទ័រក៏ជូនទៅដូចពីថ្ងៃមុន ទៅនោះនៅខ្វះប្រមាណជា ៣-៤ គីឡូម៉ែត្រទៀត ទើបដល់ទៅវត្ត ក៏ត្រូវចុះពីរថយន្តព្រោះមន្ត្រីយួនទាំងឡាយគេរង់ចាំទទួលនៅទីនោះ ហើយអញ្ជើញឲ្យឡើងទៅលើទូកឃ្នាប ដ្បិតវត្តនោះនៅក្បែរមាត់ស្ទឹងឥតមានផ្លូវរថយន្តទើបទៅបាន ឯទូកឃ្នាបនោះគឺអស់មន្ត្រីយួនគេរៀបចាត់ចែងធ្វើ ខាងលើឲ្យមានពីដាន ហើយចងទង់ជ័យខ្វាត់ខ្វែងរយាងរយាង ខាងក្រោមក្រាលក្តារមានបង្កាន់ដៃសងខាង ដាក់តុកៅអីកណ្តាល ។ កាលដែលទៅដោយទូកឃ្នាបនោះមានមន្ត្រីយួន តូច ធំ ច្រើននាក់ចុះជូនទៅផង រីឯពួកអ្នកអុំទូកនោះមុនដំបូង ខ្ញុំគិតស្មានថាជាយួនដែរ លុះទៅតែបន្តិចទៅក៏ដឹងថាសុទ្ធតែខ្មែរទាំងអស់ កាលដែលបានដឹងដូចនោះហើយ ក៏បណ្តាលឲ្យមានគំនិតគិតថែមទៅទៀតថា ពួកអ្នកអុំទូកទាំងនេះហេតុអ្វី

ក៏គ្មាន យួន តាមព្ទដំណឹងថាស្រុកនេះយួនច្រើនណាស់ខ្មែរតិចទេ ប្រហែលជាពួកមន្ត្រីយួនក្នុងស្រុកនេះ កាលបើមានការអ្វី ៗ ទំនងតែគេណ្ហ តែពួកខ្មែរឲ្យធ្វើការដើម្បីបានជាពួកខ្មែរច្រើនត្អូញត្អែរថាយួនធ្វើបាបណាស់ ឬក៏ពុំមែនដូចនោះ ព្រោះក្នុងដែននេះ ពួកមន្ត្រីយួនគេដឹងថាការនេះជាធុរៈលើពួកខ្មែរ ព្រោះកិច្ចទទួលនេះចំពោះទៅលើវត្តខ្មែរ បានជាឲ្យខ្មែរកុំទុកចាំងអស់ដូចនេះទេក៏ពុំដឹង គំនិតនេះមិនប្រាកដដូចម្តេចដែរ ។

កាលទៅដល់វត្តអរញ្ញិក ក៏ឡើងទៅលើកុដិលោកអធិការព្រោះគេរៀបចំទទួលទៅទីកុដិនោះ រីឯវត្តអរញ្ញិកនេះមិនមែនជាវត្តធំមាំមួនទេ នៅឃើញរយាកច្រើន តែលោកអធិការវត្តធ្វើឧបដ្ឋាក៍ ក្នុងកាលដែលជួបជុំលើកុដិនោះ មានលោកវត្តព្រះលានក៏មកជួបជុំជាមួយដែរ ចាងហ្វាងព្រះរាជបណ្ណាល័យបាទឡៃៈឈ្មោះ ជី ស្ល លោកទាំង ២ វត្តដូចវត្តឯទៀត តែអំពីរឿងគ្រូបង្រៀននឹងសាលាបង្រៀនលោកអធិការវត្តនេះឆ្លើយបដិសេធថាមិនត្រូវការចង់បានទេ ព្រោះឥតមានអ្នកណានឹងរៀនសូត្រទេ (លោកអធិការវត្តនេះទំនងជាឥតមានគំនិតរកផ្លូវឲ្យចេះដឹងដល់សិស្សានុសិស្ស របស់លោកទេដឹង ) លុះរួចកិច្ចនេះហើយ ក៏ត្រឡប់មកវិញដល់មកកងថី វេលាម៉ោង ១១ កន្លះជិតថ្ងៃត្រង់ ។

ដល់ម៉ោង ២ កន្លះរសៀលចេញទៅម្តងទៀត ចំពោះទៅកាន់ទីប្រជុំ

ពីរកន្លែង គឺនៅក្នុងវត្តសំរោងក្នុងឃុំឧម៉ាល ខណ្ឌថី បារ ១ កន្លែង វត្តព្រែកស្វា ក្នុងឃុំធិបញ្ញខណ្ឌជាមួយគ្នា។ កន្លែង តែទីប្រជុំទាំង ២ កន្លែងនេះ នៅត្រង់ផ្លូវដែលត្រូវទៅចំពោះទៅខេត្រ ឡូង ឈៀង ព្រោះហេតុនោះ ចាងហ្វាងព្រះរាជបណ្ណាល័យ បានឲ្យរៀបចំប្រដាប់ដំណើរជាស្រេច ក្នុងដំណើរថ្ងៃរសៀលដោយបម្រុងថា កាលបើចូលទៅកាន់ទីប្រជុំក្នុងវត្តទាំងពីរនោះហើយ នឹងបង្ហួសត្រង់ទៅឯខេត្រ ឡូងឈៀងតែម្តង ។ កាលដែលចេញទៅក្នុងវេលានេះ លោកឡាដមីនីស្ត្រាទ័រ ក៏ជូនទៅដែរដូចពីថ្ងៃមុន កាលដែលដល់ទៅវត្តសំរោង បានឃើញព្រះសង្ឃក្នុងវត្តនោះ ព្រមទាំងលោកវត្តសង្វរ ១ ទៀត ដែលមកនៅចាំទទួលរួមគ្នា ចេញមកទទួលដល់ទ្វារបងវត្ត និងមន្ត្រីយួនព្រមទាំងបណ្ដាក្រស្ដីខ្មែរ និងយួននៅចាំទទួលជាច្រើន ហើយបានឡើងទៅលើកុដិលោកអធិការ ដែលជាទីគេរៀបបម្រុងទទួល ទើបចាងហ្វាងព្រះរាជបណ្ណាល័យ បានឲ្យសួរដូចវត្តឯទៀតៗ លោកអធិការវត្តនេះបានឆ្លើយថា សុំឲ្យមានសាលាបង្រៀនក្នុងវត្តលោក និងសុំឲ្យមានគ្រូបង្រៀនជាលោកសង្ឃទៅពីភ្នំពេញ នៅវេលានោះមានឧបាសកខ្លះក៏ជួយឆ្លើយថា សុំឲ្យមានការរៀនសូត្រក្នុងទីនេះដើម្បីឲ្យបានចម្រើនខាងផ្លូវព្រះពុទ្ធសាសនាតទៅ រួចហើយចាងហ្វាងព្រះរាជបណ្ណា-ល័យបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ពដល់លោកអធិការទាំងពីរវត្ត រួច

ត្រឡប់ចេញទៅវត្តព្រែកស្វា កាលដែលទៅដល់ បានឃើញព្រះសង្ឃជាច្រើនអង្គ ១ អន្ទើដោយមន្ត្រីយួន និងបណ្ណាកស្ត្រីខ្មែរជាច្រើននៅចាំទទួល ព្រះសង្ឃដែលនិមន្តមកប្រជុំក្នុងវត្តនេះ ៣ វត្ត គឺវត្តលំពាំង ១ វត្តប្របែស ១ ជា ៤ វត្តនិងវត្តព្រែកស្វា ។ ឯការរៀបទទួលនិងការឆ្លើយតប និងសេចក្តីដែលចាងហ្វាងព្រះរាជបណ្ណាល័យសួរនោះ ទំនងដូចវត្តសំរេង ចាងហ្វាងព្រះរាជបណ្ណាល័យក៏បានប្រគេនសៀវភៅ និងរូបផ្តិត-ពុម្ពដល់ព្រះសង្ឃគ្រប់វត្ត ។

វេលាម៉ោង ៥ ល្ងាចខ្វះ ២០ មីនុត ចេញអំពីវត្តព្រែកស្វា ហើយទៅតាមផ្លូវថ្នល់ ដែលត្រង់ទៅខេត្ត ឡុង ឈៀង លោកឡាដមីនីស្ត្រាទ័រក៏ជូនដំណើររហូតដល់ផុតខេត្ត កន ថឺ ទើបឈប់ហើយលាចាងហ្វាងព្រះរាជបណ្ណាល័យ និងអស់យើងដែលទៅជាមួយ ព្រមទាំងឲ្យពរសព្ទសាធុ-ការ ហើយត្រឡប់ចូលទៅក្នុងខេត្តរបស់លោកវិញ (លោកឡាដមីនី-ស្ត្រាទ័រក្នុងខេត្ត កន ថឺ នេះឈ្មោះ ប៊ីណីតុង លោកយកចិត្តទុកដាក់ដោយក្រៃលែង លោកសម្តែងសេចក្តីគួរសម ដោយរាក់ទាក់ដល់អស់យើង ដូចជាឥតមានសេចក្តីប្រកាន់ជាតិនិងយសសក្តិឡើយ លោកបានជូនដំណើរដោយខ្លួនលោកគ្រប់កន្លែង ដែលត្រូវទៅក្នុងខេត្តរបស់លោកដរាបដល់ហើយស្រេច) ហើយយើងទាំងអស់គ្នាបានចេញពីទីនោះបាន

ដល់ទៅខែត្រ ឡុង ឈៀង ខ្មែរហៅបាកង នៅវេលាម៉ោង ៦ ល្ងាច តាំងហ្វូងព្រះរាជបណ្ណាល័យទៅឈប់សំណាក់នៅផ្ទះលោកឡាដមីនីស្ត្រាទ័រ ឯខ្ញុំនិងឈ្មោះ ជី ទៅឈប់សំណាក់នៅផ្ទះប័ង្គលោ ។

ដំណើរក្នុងខែត្រ ឡុង ឈៀង ថ្ងៃ២ខែហ្វេវ្រីយេរ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ កន្លះព្រឹក ចេញឆ្ពោះទៅវត្តបាថេដោយកាណូតតាមផ្លូវព្រែកជីក ក្នុងដំណើរនេះលោកឡាដមីនីស្ត្រាទ័របានចាត់ប៉ាំងម្នាក់ឲ្យជាអ្នកជូនដំណើរទៅ កាលដែលទៅតាមព្រែកជីកនោះទៅមិនឆ្ងាយប៉ុន្មាន ក៏បានឃើញវត្តលោកសង្ឃខ្មែរ ១ នៅមាត់ព្រែកទៅជាខាងស្តាំដៃ ឃើញវិហារបាក់បែកធ្លុះធ្លាយ ដំបូលពីលើធ្លាក់ជ្រុះក្បឿងអស់ ខ្ញុំក៏នឹកស្មានថាជាវត្តឥតលោកសង្ឃជាវត្តគេបោះបង់ចោលហើយ លុះដល់សួរគេជាខាងក្រោយ ទើបបានដឹងថាវត្តនោះឈ្មោះវត្តបាកង សព្វថ្ងៃនេះមានលោកសង្ឃតែ ១ អង្គ ជួនកាលក៏មាន ២ អង្គ វត្តនេះតាមស្មានមើលទៅៗខាងមុខនឹងវិនាសផុតឥតមានលោកសង្ឃ ហើយនឹងត្រឡប់ទៅជាទីកួមអ្នកស្រុកគេនៅ ព្រោះទីនោះមិនសូវមានជាតិខ្មែរអ្នកកាន់ព្រះពុទ្ធសាសនាជាអ្នកម៉ាំមួននៅថែរក្សាមានបន្តិចបន្តួច ច្រើនមានតែជាតិយួន តាមក្បែរមាត់ព្រែកសងខាងច្រើនមានតែផ្ទះយួន ដែលជាអ្នករកស៊ីនេសាទនឹងរកស៊ី

ស្រូវ លុះដល់ទៅជិតស្រុកបាថេទើបឃើញមានខ្មែរខ្លះ នៅក្បែរមាត់ព្រែកជាអ្នករកស៊ីនេសាទដូចពួកយួន ។ កាលដែលទៅដល់ស្រុកបាថេវេលាម៉ោង ១១ ព្រឹក ស្រុកនោះនៅទីបំផុតព្រែកជ្រីកហើយប្របភ្នំបាថេ លុះឡើងពីកាណូតទៅ ចាងហ្វាងព្រះរាជបណ្ណាល័យក៏ឡើងទៅទទួលអាហារនៅទីសាលា ១ ជាមួយនិងបារាំងម្នាក់ដែលជូនទៅនោះ ខ្លួនខ្ញុំនិងឈ្មោះ ដី បានហួសទៅឯវត្តបាថេ កាលចូលទៅដល់វត្ត បានឃើញលោកអធិការវត្តព្រមទាំងលោកសង្ឃក្នុងវត្តនោះចុះមកទទួល ហើយបានឡើងទៅលើសាលាក្នុងពេលនោះ ឃើញមានមនុស្សស្រីប្រុសជាតិខ្មែរនាំគ្នាមកឈូឆរចំនួនប្រហែល ៦០ នាក់ មនុស្សស្រុកនោះមានភាសាសម្តីមិនច្រលំទេ សម្តីច្បាស់លាស់គ្រាន់បើ តែទំនងស្លៀកពាក់កកល់ប្រឡំនិងជាតិយួនខ្លះ ស្រី ៗ មានទុកសក់បួងដូចយួនជាច្រើនដែលគាត់សក់មានតិចគ្នា ។ កាលដែលខ្ញុំបានទទួលចង្ហាន់រួចហើយ បានសួរអស់ទាំងឧបាសកស្រី ប្រុស ជាអ្នកទាំងអស់គ្នាដែលបានមកជួបជុំនៅទីនេះ មានគេបង្គាប់ឲ្យមក ឬក៏មកដោយចិត្តឯងទេ ឬ ដោយមានការដូចម្តេច ។ មនុស្សទាំងនោះក៏ឆ្លើយថា មិនមានអ្នកណាបង្គាប់ឲ្យមកទេ ប៉ុន្តែដឹងថាមានលោកនិមន្តមកពីភ្នំពេញ បានជានាំគ្នាមកមើលចង់ស្គាល់ ហើយខ្ញុំសួរគេទៅទៀតថា ចុះជាតិខ្មែរក្នុងស្រុកនេះ មកអស់ប៉ុណ្ណឹង

ហើយប្អ៊ី ឆ្លើយថានៅច្រើនណាស់ ព្រោះមិនបានដឹងដំណឹងប្រសិនណា
បើដឹងមុន នឹងមកច្រើនគ្នា សាលាប៉ុណ្ណោះ ២ ក៏អង្គុយមិនអស់គ្នាដែរហើយ
គេប្រាប់ថាជាតិខ្មែរនៅ ៗ ស្រុកនេះមានតែភូមិបាថេ ១ នេះទេ នៅជុំវិញ
ភ្នំបាថេសុទ្ធតែជាតិខ្មែរទាំងអស់ ៗ លុះយូរបន្តិច ទើបតាងហ្វាងព្រះរាជ
បណ្ណាល័យអញ្ជើញទៅដល់ បានឲ្យសួរលោកអធិការដូចវត្តឯទៀតលោក
អធិការនោះក៏បាននិយាយសុំឲ្យមានសាលារៀន និង គ្រូបង្រៀនពីភ្នំពេញ
លុះរួចកិច្ចនេះហើយ តាងហ្វាងព្រះរាជបណ្ណាល័យ ក៏ចេញពីវត្តទៅ
កាន់ទី ១ ផ្សេង ដើម្បីនឹងមើលរបស់ដែលតាំកក្នុងស្រុកនោះ ជាមួយនឹង
បារាំងម្នាក់ និងមេឃុំព្រមទាំងឈ្មោះ ជី ឯខ្លួនខ្ញុំនៅ ៗ វត្តនោះបានប្រជុំ
លោកសង្ឃនិងឧបាសក ស្រីប្រុស ឲ្យមកជួបជុំគ្នាក្នុងទីសាលាវត្ត ហើយ
ខ្ញុំបាននិយាយពន្យល់ពីព្រះពុទ្ធសាសនា ដែលជាទីស្រោចស្រង់សត្វឲ្យរួច
ពីសេចក្ដីល្ងង់ និង សេចក្ដីទុក្ខគ្រប់យ៉ាង ហើយបាននិយាយពីច្បាប់ព្រះ
ពុទ្ធសាសនា ជាសេចក្ដីឲ្យនឹករំលឹកដល់ព្រះសង្ឃនិងឧបាសកខ្លះ បណ្ដា-
ព្រះសង្ឃនិងឧបាសកទាំងអស់នោះ ក៏ចេះស្ដាប់ដោយសម្ងាត់កល់គ្នា ខ្ញុំ
អធិប្បាយប្រហែលជា ១ ម៉ោង ក៏ប្រាប់ថាចប់ហើយ ទើបមានឧបាសក
ចាស់ ៗ ខ្លះឆ្លើយថា យើងខ្ញុំទាំងអស់គ្នាតាំងពីកើតមកដរាបដល់ឥឡូវ
ណេះ មិនដែលបានឮពាក្យពីរោះដូច្នេះទេ ពាក្យនេះជាទុកទ យើងខ្ញុំត្រូវ

ទទួលទុកលើសិរសា ប្រសិនណាបើជាយើងខ្ញុំធ្លាប់ដែលបានស្តាប់ដូចនេះពីមុនមកខ្លះ សមនឹងបានរក្សាសីលច្រើនណាស់ហើយ យើងខ្ញុំដែលនៅស្រុកនេះ សុទ្ធតែធ្វើបាណាតិបាតគ្រប់គ្នា ដោយមិនដឹងបុណ្យបាបឲ្យច្បាស់លាស់ ព្រោះមិនដែលមានអ្នកណា ១ មកសម្តែងទូន្មានប្រាប់សេចក្តីខុសត្រូវឡើយ អ្នកស្រុកនោះតាមសង្កេតមើលទៅឃើញថាឥតចេះដឹង ធម៌តាមគន្លងព្រះពុទ្ធសាសនាទេ តែមានសន្តានចិត្តល្អច្រើន មិនសូវមានប្រកាន់អស្មិមានះ ។

ដល់ម៉ោង ៤ រសៀល ក៏ត្រឡប់ពីស្រុកបាថនោះមកវិញ តាមផ្លូវដដែល ដល់ម៉ោង ៩ យប់បានដល់មកទីសំណាក់ដើមវិញ ។

ថ្ងៃ ៣-៤-៥-៦- ខែហ្វេវ្រីយេ ឆ្នាំ ១៩២៨

ចាងហ្វាងព្រះរាជបណ្ណាល័យ មានកិច្ចត្រូវបួលទៅព្រៃនគរតាំងពីថ្ងៃ ៣ ដល់ថ្ងៃ ៦ ទើបត្រឡប់មកដល់ ឡុងឈៀងវិញ ចំណែកខ្លួនខ្ញុំទីងឈ្មោះ ជី បានសំណាក់នៅបន្តលោ យកពេលឱកាសតែងរឿងនេះ ដរាបដល់ចាងហ្វាងព្រះរាជបណ្ណាល័យត្រឡប់មកដល់វិញ ។

## ដំណើរចេញពីខេត្តឡុងឈៀង ថ្ងៃ ៧ ខែហ្វេវ្រីយេ ឆ្នាំ ១៩២៨

វេលាព្រឹកម៉ោង ៧ និង ២០ មិនុត ចេញពីឡុងឈៀងចំពោះនៅ

ខេត្រចូដុក (ខ្មែរហៅមាត់ជ្រូក) ដល់ម៉ោង ៨ កន្លះក៏បានទៅដល់ខេត្រ មាត់ជ្រូក ។

ចាងហ្វាងព្រះរាជបណ្ណាល័យបានចាត់ចែងដាក់របស់នៅផ្ទះប័ង្គលោ ដើម្បីនឹងឈប់សំណាក់នៅទីនោះ ចំណែកខ្លួនខ្ញុំនិងឈ្មោះ ដី លោក ឡាដមីនីស្រ្តាទ័រ បានចាត់ឱ្យអ្នករាជការយួន ១ នាក់ នាំទៅទុកដាក់របស់ ឯវត្តលោកសង្ឃយួន ឈ្មោះថាវត្តផាប់យ៉ារ ដែលនៅជិតប៉ុស្តិ៍ ដើម្បីនឹង ឱ្យសំណាក់ក្នុងវត្តនោះ ។

## ដំណើរក្នុងខេត្តមាត់ជ្រូក

វេលាម៉ោង ១០ ព្រឹកក្នុងថ្ងៃជាមួយគ្នា ចេញពីមាត់ជ្រូកចំពោះទៅ ស្រុកទិញបៀង (ខ្មែរហៅក្រចៅ) ចម្ងាយពីមាត់ជ្រូកទៅ ២៦ គីឡូម៉ែត្រ ដល់ម៉ោង ១០ កន្លះព្រឹកក៏បានដល់ទៅទិញបៀង ។ នោះជាទីចៅ-ហ្វាយស្រុកយួននៅធ្វើការ ហៅថា ថេឡេគាស៊ុង ចៅហ្វាយស្រុកនោះ ក៏ចេញមកទទួលចាងហ្វាងព្រះរាជបណ្ណាល័យ ដោយបានដំណឹងតាំងពីថ្ងៃ មុន ហើយក៏ឡើងមកលើរថយន្តជាមួយ ជូនដំណើរចំពោះទៅវត្តលោក សង្ឃខ្មែរ ១ រំពេច វត្តនោះឈ្មោះវត្តគិរីវង្ស ចម្ងាយពីទិញបៀង ២ គីឡូម៉ែត្រ កាលដែលទៅដល់ក៏បានឃើញលោកសង្ឃនិងឧបាសកជា ច្រើន នៅចាំទទួលនៅក្នុងទីវត្តនោះ មានលោកអធិការវត្ត ១ ទៀត

ឈ្មោះវត្តត្រាសក៏បានមកនៅជួបជុំក្នុងទីនោះដែរ ។ (ឯមនុស្សក្នុងស្រុកនេះមានសម្តីនិយាយនិងទំនងបែបបទមិនខុសគ្នានឹង មនុស្សក្នុងស្រុកខ្មែរយើងប៉ុន្មាន ព្រោះស្រុកនេះជាស្រុកនៅប្រទល់នឹង ដែនស្រុកខ្មែរ គឺជាប់គ្នានឹងខែត្រតាកែវ) លោកអធិការវត្តគិរីវង្ស បាននាំអស់យើងទៅកាន់ស្ថាន ១ ដែលគេរៀបចំទទួលក្នុងទីវិហារដែលកំពុងសង់ លុះជួបជុំព្រមគ្នាក្នុងទីនោះ ហើយចាងហ្វាងព្រះរាជបណ្ណាល័យបានសួរដូចវត្តឯទៀត រួចបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ពដល់លោកអធិការទាំង ២ វត្តនោះ រួចហើយក៏អញ្ជើញទៅទទួលអាហារឯផ្ទះចៅហ្វាយស្រុកយួន ខ្លួនខ្ញុំនិងឈ្មោះ ជី នៅទទួលភោជនាហារក្នុងវត្ត គិរីវង្សនោះឯង លុះរួចពេលអាហារហើយ ព្រះសង្ឃនិងឧបាសកទាំងអស់ទៅប្រជុំគ្នាក្នុងទីដដែលដោយចង់ស្តាប់រឿងព្រះពុទ្ធសាសនា ខ្ញុំក៏បានទៅសម្តែងអំពីរឿងព្រះពុទ្ធសាសនាតាមសមគួរដល់ពេលវេលាតិច ក្នុងវេលានោះចាងហ្វាងព្រះរាជបណ្ណាល័យ ក៏បានអញ្ជើញមកដែរ ហើយប្រារព្ធនឹងចេញពីវត្តនោះឆ្ពោះទៅវត្ត ១ ទៀត ក៏បណ្តាព្រះសង្ឃនិងឧបាសកទាំងអស់ មានលោកចៅហ្វាយខណ្ឌជាតិខ្មែរជាដើម យល់ឃើញថាពេលដែលបានស្តាប់ពីផ្លូវព្រះពុទ្ធសាសនាតិចពេក ទើបបានជំរាបចាងហ្វាងព្រះរាជបណ្ណាល័យថា សុំអញ្ជើញសុំនិមន្តមកម្តងទៀត ដើម្បីនឹងប្រជុំគ្នាស្តាប់ពីផ្លូវព្រះពុទ្ធសាសនា

ឲ្យបានច្រើនបន្តិច ចាងហ្វាងព្រះរាជបណ្ណាល័យ ក៏បានលៃលកពេលវេលាទៅ ឃើញថាល្មមមកម្តងទៀតបាន ទើបប្រាប់ថាដល់ថ្ងៃ ១០ ខែ ហ្វេវ្រីយេរ ជាថ្ងៃត្រូវចេញពីខេត្តនេះ ទៅខេត្តបាទៀង សុំធ្វៀតចូលមក១ពេលទៀត ហើយ នឹងបង្ហួសទៅបាទៀង ព្រោះវត្តនេះនៅជិតផ្លូវដែលត្រូវទៅឯបាទៀង ព្រះសង្ឃនិងឧបាសកទាំងអស់ ក៏ត្រេកអរពល់គ្នាបំរុងនឹងមកប្រជុំគ្នាក្នុងថ្ងៃ ១០ នោះទៀត ។

ដល់ម៉ោង ២ រសៀល ក៏ចេញពីវត្តគិរីវង្សត្រង់ទៅវត្តជីទតដែលទៅក្នុងគ្រានេះ លោកចៅហ្វាយស្រុកយួនមិនបានជូនដំណើរទៅទេ បានផ្ដុកផ្ដាក់ឲ្យចៅហ្វាយខណ្ឌខ្មែរម្នាក់ជាអ្នកជូនដំណើរទៅ ។ កាលដែលដល់ទៅវត្តជីទត បានឃើញព្រះសង្ឃច្រើនអង្គនិងឧបាសកឧបាសិកាជាច្រើននៅចាំទទួល ព្រះសង្ឃដែលមកជួបជុំក្នុងវត្តនេះមាន៦ វត្ត ជា ៧វត្តនិងវត្តជីទតផង ជាធម្មយុត្តិកនិកាយខ្លះ មហានិកាយខ្លះ ឯវត្តទាំង៦ នោះគឺ ១ វត្តត្នោត(ធម្មយុត្ត) ២ វត្តធម្មនិម្មិត (ធម្មយុត្ត) ៣ វត្តព្រាល (មហានិកាយ) ៤វត្តសុពរលើក(ធម្មយុត្ត) ៥វត្តដើមជ្រៅប (មហានិកាយ) ៦វត្តសុត្តាវង្ស(ធម្មយុត្ត) ឯវត្តជីទតក៏ជាវត្តធម្មយុត្តិកនិកាយដែរ ។ កាលដែលជួបជុំនៅលើសាលាវត្តជីទត ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរដូចវត្តឯទៀត រួចហើយបានពន្យល់អំពីកិច្ចការ ដែលនាំឲ្យព្រះពុទ្ធសាសនាបានចម្រើនឡើង និងនិយាយដាស់តឿនដល់ពួកខ្មែរ ឲ្យយក

ចិត្តទុកដាក់ក្នុងការរៀនសូត្រ ដើម្បីនឹងបានដោះខ្លួនឲ្យរួចផុតអំពីសេចក្តីល្ងង់ រួចបានប្រគេនសៀវភៅនិងរូបថតព្រះពុទ្ធ ដល់លោកទាំង ៧វត្ត បណ្តាព្រះសង្ឃទាំងអស់ចំនួន៤០អង្គ និងឧបាសកចំនួនប្រហែល១២០នាក់ ក៏សម្តែងឲ្យឃើញដូចជាមានសេចក្តីត្រេកអរគ្រប់គ្នា ។

ដល់ម៉ោង៤រសៀលខ្វះ១៥មីនុត ក៏ចេញពីវត្តនោះចំពោះទៅវត្តមួយទៀត ឈ្មោះវត្តគោករំផែងជាវត្តមហានិកាយ នៅក្នុងខណ្ឌជាមួយគ្នា លោកសង្ឃក្នុងវត្តនេះ មានរបៀបស្លៀកពាក់រៀបរយគ្រាន់បើ ព្រោះលោកអធិការនេះធ្លាប់បានទៅនៅរៀនសូត្រ ឯទីជិតក្រុងភ្នំពេញ ចាង៉ហ្វាងព្រះរាជបណ្ណាល័យមិនបាននៅយូរ ក្នុងវត្តនោះព្រោះពេលវេលាតិចគ្រាន់តែបានសួររួចប្រគេនសៀវភៅនិងរូបថតព្រះពុទ្ធដូចវត្តឯទៀត ហើយក៏ត្រឡប់មកឯមាត់ជ្រូកវិញ ដល់ជាង ម៉ោង៥ល្ងាចដល់មកឯមាត់ជ្រូកចាង៉ហ្វាងព្រះរាជបណ្ណាល័យ ទៅឈប់សំណាក់នៅផ្ទះបង្គោល ខ្លួនខ្ញុំនិងឈ្មោះ ជី ទៅឈប់សំណាក់នៅវត្តលោកសង្ឃយួន ដែលយើងបានយករបស់ទៅទុកតាំងពីពេលព្រឹក ឯលោកសង្ឃយួនក្នុងវត្តនេះ កាលខ្ញុំទៅដល់ ក៏ទទួលរាក់ទាក់ប្រាស្រ័យដោយគួរសម ហើយរៀបចំទីកន្លែងឲ្យសំណាក់ ស្រួលបួលណាស់ ខ្ញុំមានអំណរគុណលោកដោយច្រើន ដោយលោកមានចិត្តស្លូតបូតល្អ បានធ្វើបដិសណ្ឋារៈនិងសម្តែងសេចក្តីរាប់អានពេញបន្ទុក ។

ថ្ងៃ ៨ ខែហ្វេវ្រីយេ ឆ្នាំ ១៩២៨

វេលាព្រឹកម៉ោង ៧ និង ១៥ មីនុត ចេញពីមាត់ជ្រូកឆ្ពោះទៅស្រុកទ្រីតុង ( ខ្មែរហៅស្វាយទង ) ដល់ម៉ោង ៨ កន្លះព្រឹកក៏ដល់ទៅទ្រីតុង ទើបលោកចៅហ្វាយស្រុកនៅទ្រី តុង ចេញមកទទួលចាងហ្វាងព្រះរាជបណ្ណាល័យដោយសេចក្ដីរាក់ទាក់លោកចៅហ្វាយនេះជាតិជាខ្មែរនាម ស្ងួន ស្រុកកំណើតនៅក្នុងទ្រីតុងនេះ ដែលបានយកចិត្តទុកដាក់ ជួយជូនដំណើរចាងហ្វាងព្រះរាជបណ្ណាល័យ ដរាបដល់ហើយកិច្ច អង្គួរណោក្នុងទ្រីតុងនេះ ៗ ក្នុងវេលាដែលទើបនឹងដល់ទៅនោះ លោកចៅហ្វាយស្រុកចាស់ឈ្មោះ គិម គួយ ក៏បានមកជួបនិងចាងហ្វាងព្រះរាជបណ្ណាល័យដែរ ហើយបានជូនទៅវត្ត ស្វាយ ទង ១ នេះនៅចំពីមុខសាលាខែត្រ ទ្រី តុង ជាវត្តគឺលោកចៅហ្វាយស្រុក គិម គួយ លោកបានកសាងនិងទំនុកបម្រុងមកជាយូរឆ្នាំហើយ កាលដល់ទៅវត្តក៏បានឡើងទៅលើសាលា១ នោះក៏ជារបស់លោកចៅហ្វាយស្រុកចាស់ គិម គួយ បានកសាងនិងទំនុកបម្រុងមកជាយូរហើយ ប្រយោជន៍នឹងចង់បង្កើតឲ្យមានអាចារ្យបង្រៀនព្រះត្រៃបិដកក្នុងទីនោះ តែបានដឹងថាសេចក្ដីប្រាថ្នារបស់លោកចៅហ្វាយស្រុក គិម គួយ នោះមិនបានសម្រេច ដោយមានហេតុទាក់ទាមអំពីលោកសង្ឃក្នុងវត្តខ្លះ អំពីហេតុក្រៅវត្តខ្លះ នាំបណ្ដាលមិនឲ្យសម្រេចដូចសេចក្ដីប្រាថ្នា គួរឲ្យស្ដាយពេក ៗ

លុះដល់ទៅជួបជុំនៅលើទីសាលាជាមួយនឹងលោកអធិការវត្ត ចាន់ហ្វាង ព្រះរាជបណ្ណាល័យ បាននិយាយអំពីការគិតបង្កើតឲ្យមានសាលាបង្រៀន និងចាត់គ្រូបង្រៀនអំពីភ្នំពេញ ដើម្បីឲ្យបង្រៀនក្នុងទីនេះ តាមសេចក្ដីប្រាថ្នារបស់លោក គួរតែណើរដីឡាក្លូសាំងស៊ីន នោះលោកចៅហ្វាយស្រុក សួន ក៏យល់ព្រមតាមដោយសេចក្ដីត្រេកអរ ទាំងលោក គិម គួយ ចៅហ្វាយស្រុកចាស់ ក៏មានអំណរដោយក្រៃលែង ព្រោះត្រូវនឹងគំនិតបំណុចចិត្តរបស់លោក ដែលគិតទុកជាយូរមកហើយ ។ លោក គិម គួយ បាននិយាយថា ខ្ញុំបានសាងសាលាទាំង ៣ នេះ ភ្ជាប់ជាមួយគ្នា ហើយបានឲ្យធ្វើការតាប្ និង តុ កៅអី ទុកសម្រាប់បង្រៀនក្នុងសាលានេះជាយូរឆ្នាំហើយ អស់ប្រាក់ចំនួនជាង ១ ហ្មឺន ៨ ពាន់រៀល ដើម្បីបម្រុងឲ្យមានគ្រូបង្រៀនក្នុងសាលានេះ តែមិនសម្រេចគ្រឿងប្រដាប់រៀនសូត្រក្នុងសាលានេះ ក៏បាក់បែកខូចខាតអស់ទៅជាច្រើន តែឥឡូវនេះបើរាជការជួយរំទុកបម្រុងបង្កើតឲ្យមានគ្រូបង្រៀនដូចនោះ បំណែកសាលារបស់ខ្ញុំមានស្រាប់ហើយ ឯគ្រឿងប្រដាប់រៀនមាន តុ កៅអី ជាដើម ខ្ញុំក៏នឹងគិតចាត់ចែងធ្វើបំពេញឡើងទៀត ឲ្យគ្រប់គ្រាន់ សុំតែឲ្យលោក ចាន់ហ្វាង ព្រះរាជបណ្ណាល័យ ជួយឲ្យបានរាជការបាត់គ្រូមកបង្រៀនក្នុងទីសាលាវត្តនេះឲ្យបានជាឆាប់ ៗ លោក សួន ចៅហ្វាយស្រុកសព្វថ្ងៃក៏យល់ព្រមតាមថា គួរនឹងបង្កើតឲ្យមានគ្រូបង្រៀនក្នុងសាលាវត្តនេះព្រោះវត្តនេះជាវត្តធំម្នាំមួន ហើយនៅជិតសាលាខេត្រផង ៗ លុះរួចហើយក៏

ចុះពីសាលាឡើងទៅមើលវិហារ ។ នោះក៏គឺលោក គិម គួយ ចៅហ្វាយស្រុកចាស់ លោកជាដើមការកសាងដែរ ចាងហ្វាងព្រះរាជបណ្ណាល័យបានសរសើរថា ធំទូលាយហើយស្អាតល្អ តាំងគំនូរដែលគូរនៅជញ្ជាំងក៏ល្អណាស់ លុះរួចកិច្ចក្នុងវត្តនេះហើយ លោកចៅហ្វាយស្រុក សួន បាននាំចាងហ្វាងព្រះរាជបណ្ណាល័យចូលទៅវត្ត ១ ទៀត ហៅវត្តព្រៃវែង នៅជិត ទ្រី តុង នោះដែរ វត្តព្រៃវែងនោះជាវត្តលោកធម្មយុត្តិកនិកាយតែកាលដែលដល់ទៅ បានឃើញលោកសង្ឃចុះមកទទួលច្រើនអង្គ ខ្ញុំមិនស្គាល់ថាជាធម្មយុត្តិ ព្រោះឃើញអាការប្រកបានិងពាក់ស្បង់ចីពរ ទំនងដូចជាមហានិកាយ ក៏ស្មានថាជាមហានិកាយ លុះសួរគេទៅក៏ដឹងថាជាធម្មយុត្តិទេ យើងដឹងវែងបន្តិចទៅទៀតដោយមានគេប្រាប់ថា វត្តព្រៃវែងនេះជាវត្តធម្មយុត្តិពិត តែធ្វើអាការរកកលដូចលោកមហានិកាយ បានជាពួកឧបាសក ឧបាសិកា ដើងវត្ត ទ្រី តុង មហានិកាយច្រើននាក់ដែលមិនចូលចិត្តនឹងលោកអធិការវត្ត ទ្រី តុង សព្វថ្ងៃនេះ នាំគ្នាលែងធ្វើបុណ្យឯវត្តទ្រី តុង បែរចូលមកធ្វើបុណ្យឯវត្តព្រៃវែងនេះវិញជាច្រើន ។ កាលចូលទៅដល់ហើយបានឡើងទៅជួបជុំនៅលើសាលាវត្ត ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរនិងប្រគេនសៀវភៅ រូបថតពុម្ពដល់លោកអធិការដូចវត្តឯទៀត រួចចុះទៅមើលវិហារហើយក៏ត្រឡប់មកឯសាលាខេត្ត ទ្រី-តុងវិញ ។ ចាងហ្វាងព្រះរាជបណ្ណាល័យបានទទួលអាហារនៅផ្ទះលោក

ចៅហ្វាយស្រុក ស្នួន ខ្ញុំលោកចៅហ្វាយស្រុកចាស់ និមន្តឲ្យទទួលភត្តឯផ្ទះលោក ។

ដល់វេលាម៉ោង១រសៀល ចេញទៅម្តងទៀតបំពោះវត្តដែលនៅជិតៗថ្នល់ លោកស្នួនចៅហ្វាយស្រុកសព្វថ្ងៃនិងលោកគិម-គួយ ចៅហ្វាយស្រុកចាស់ក៏ជូនទៅដែរ ដំណើរទៅក្នុងថ្ងៃរសៀលនេះជាដំណើរប្រញាប់រួសរាន់ និងត្រឡប់ទៅមាត់ជ្រូកវិញ ដោយចាងហ្វាងព្រះរាជបណ្ណាល័យមានការ ត្រូវជួបនឹងលោកឡាដមីនិស្ត្រាទ័រនៅមាត់ជ្រូក ក្នុងវេលាម៉ោង៤រសៀល ព្រោះហេតុនោះចូលវត្តមួយៗ គ្រាន់តែសួរបន្តិចបន្តួច ហើយប្រគេនសៀវភៅនិងរូបផ្តិតពុម្ពរួចក៏បង្ហួសទៅទៀត ឯដំណើរទៅនេះ បានចូលទៅវត្តពោធិលាស់ វត្តទ្រាក វត្តត្នោតជ្រុំ វត្តព្រះធាតុ បានចូលតែ៤វត្តប៉ុណ្ណោះ ក៏ដល់ពេលម៉ោង២រសៀលនិង ២០ មីនុត ទើបត្រឡប់ទៅមាត់ជ្រូកវិញ ដល់ម៉ោង៤រសៀលបាននៅដល់មាត់ជ្រូក ចាងហ្វាងព្រះរាជបណ្ណាល័យបានចូលទៅជួបនិងលោកឡាដមីនិស្ត្រាទ័រ បានប្រឹក្សាអំពីការប្រជុំទាហានខ្មែរ ដើម្បីនឹងឲ្យខ្ញុំ ទៅនិយាយពន្យល់ អំពីការមានប្រយោជន៍ក្នុងព្រះពុទ្ធសាសនាជាដើម ។

ថ្ងៃ ៩ ខែហ្វេវ្រីយេ ១៩២៨

វេលាម៉ោង៨ព្រឹក លោកកាពីតែនជានាយកត្រួតទាហាន ក្នុងកម្ប៉ាញីទី ៨ បានប្រជុំទាហានខ្មែរទាំងអស់ចំនួន ១២០ នាក់ ក្នុងទីប្រជុំ

នោះ លោកឡាដមីនីស្ត្រាទ័រ ចាងហ្វាងព្រះរាជបណ្ណាល័យ លោកកាពីតែន និងមេទាហានទាំងអស់ បានជួបជុំក្នុងទីកេងទាហានទាំងអស់គ្នា ហើយមានលោកសង្ឃ ២ អង្គទៀតទៅវត្តឧត្តុង្គថើងកេរ្តិ៍ រាជការបានឲ្យនិមន្តមកជួបជុំក្នុងទីនោះផងដែរ ចំណែកខ្លួនខ្ញុំ បានចូលទៅឈរក្នុងកណ្តាលទីប្រជុំជាខាងមុខពួកទាហាន ហើយបាននិយាយពន្យល់ដល់អស់ពួកទាហានខ្មែរតាមមាតិកា សេចក្តីដូចមានខាងក្រោយនេះ ៖

១ អំពីតម្លៃនៃព្រះពុទ្ធសាសនា ។ ២ អំពីលទ្ធិព្រះពុទ្ធសាសនាដែលពួកអ្នកកាន់ព្រះពុទ្ធសាសនា ត្រូវប្រតិបត្តិធ្វើតាម ។ ៣ អំពីការសំអាត ។ ៤ អំពីទោសនៃសេចក្តីល្ងង់ ។ ៥ អំពីអានិសង្សនៃការចេះដឹង ។

សេចក្តីអធិប្បាយក្នុងមាតិកាខាងដើមនេះ មិនបានចារឹកទុកក្នុងទីនេះទេ បានស្រង់ចេញធ្វើជាសៀវភៅតូច ១ ផ្សេងដោយឡែក ។

ខ្ញុំបាននិយាយពន្យល់ អស់ពេលចំនួន៣០មីនុត លុះរួចហើយបណ្តាទាហានទាំងអស់ ក៏មានសេចក្តីសោមនស្សត្រេកអរ សម្តែងសេចក្តីកក់ទាក់ រីករាយឈ្ងួងរ មកឈរចោមរោមជុំខ្លួនខ្ញុំ ។ រួចចាងហ្វាងព្រះរាជបណ្ណាល័យ ត្រូវការទឹងទៅមើលវត្តឧត្តុង្គថើងកេរ្តិ៍ ទើបលោកកាពីតែនបានចាត់ឲ្យទាហាន២នាក់ចែវទូកជូនទៅ ព្រោះវត្តនោះឥតមានផ្លូវទឹងទៅដោយរថយន្តបាន កាលដែលទៅដល់បានឃើញវត្ត

នោះជាវត្តតូចស្តួចស្តើងណាស់ ហើយបានសួរ លោកអធិការជួបវត្តឯទៀត ហើយចូលទៅមើលវិហារ រួចត្រឡប់មកឯមាត់ជ្រូកវិញ ។

ដល់ម៉ោង ១២ ថ្ងៃត្រង់ចេញទៅឯ ទ្រីតុង ម្តងទៀត ដើម្បីនឹងចូលទៅមើលវត្តដែលមិនទាន់បានចូលមើលពីថ្ងៃមុន ដល់ម៉ោង ១ រសៀល ដល់ទៅ ទ្រីតុង លោកចៅហ្វាយស្រុក សួន ក៏បានជូនដំណើរក្នុងវេលាថ្ងៃរសៀលនេះដូចពីថ្ងៃមុន មុនដំបូងបានចូលទៅវត្តដី ភ្លើង ក្នុងខ័ណ្ឌ ថាញ-អី លោកអធិការវត្តនេះ លោកចាស់ជរាណាស់ហើយ តែមានលោកគ្រូសូត្រ ១ អង្គ លោកយកចិត្តទុកដាក់ក្នុងការរៀនសូត្រគ្រាន់បើ បានប្រិតប្រៀនលោកសង្ឃក្នុងវត្តនេះ ឲ្យចេះស្ទៀកពាក់ និងឲ្យមានសភាពរៀបរយល្អគ្រាន់បើ ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរជួបវត្តឯទៀត ហើយបានប្រគេនសៀវភៅ និងរូបថតពុម្ពដល់លោកអធិការរួចចូលទៅមើលវិហារ ហើយក៏ចេញពីវត្តនោះឆ្ពោះទៅវត្តក្ពំពីរក្រោម ជាវត្តលោកធម្មយុត្តិកនិកាយ កាលទៅដល់វត្តនេះ បានឃើញរបៀបដែលលោករៀបចំទទួលដោយស្រួលបួល មានលោកវត្តឯទៀត ២ វត្តជាវត្តធម្មយុត្តិដូចគ្នា មកនៅជួបជុំនឹងវត្តនេះដែរ គឺវត្តក្ពំពីរលើ ១ វត្តគិរបូរ ១ ។ ចាង-ហ្វាងព្រះរាជបណ្ណាល័យ បានសួរលោកអធិការទាំង ៣ វត្ត ទំនងជួបវត្តឯទៀត រួចបានប្រគេនសៀវភៅនិងរូបថតពុម្ពដល់លោកអធិការទាំង ៣ វត្តនោះ ៗ នៅក្នុងវត្តក្ពំពីរក្រោមនេះ លោកទើបនឹងសង់សាលាបង្រៀន

មួយហើយស្រេច ក្នុងពេលដែលជួបជុំនោះ លោកបាននិយាយនឹងចាង-
ហ្វាងព្រះរាជបណ្ណាល័យ ថាត្រូវការចង់បានគ្រូបង្រៀន ១ មកបង្រៀន
ក្នុងសាលានោះ ហេតុដូចនោះចាងហ្វាងព្រះរាជបណ្ណាល័យ បានគិតទុក
ថាវត្តនេះ គួរនឹងឲ្យមានគ្រូបង្រៀនលោកសង្ឃ ១ អង្គ ជាធម្មយុត្តិកនិ-
កាយពីភ្នំពេញ ដើម្បីនឹងបានបង្រៀនអស់ទាំងបណ្ដាលោកសង្ឃធម្មយុត្តិ
ក្នុងខណ្ឌនេះ លុះរួចកិច្ចនេះហើយបានចូលទៅមើលវិហារ រួចចេញពីវត្ត
នេះ បត់តម្រង់ទៅវត្តក្រាំងគ្រូចជាវត្តមហានិកាយក្នុងខណ្ឌ ថាញ ថាប
កាលទៅដល់បានឃើញលោកសង្ឃនិងឧបាសក ឧបាសិកា ជាច្រើន នៅ
ចាំទទួលក្នុងវត្ត ហើយបានឡើងទៅជួបជុំលើសាលាវត្ត មានលោកវត្ត
ឯទៀត ៤ វត្តមកប្រជុំក្នុងទីនោះដែរ វត្តមហានិកាយ ៣ វត្ត គឺវត្តពង្រ ១
វត្តក្រាំងធូក ១ វត្តចិន ១ វត្តធម្មយុត្តិ ១ វត្ត គឺវត្តទួលតាស់ ១ រួមទាំងវត្ត
ក្រាំងគ្រូច ១ ទៀត ត្រូវជា ៥ វត្ត ។ ចាងហ្វាងព្រះរាជបណ្ណាល័យបាន
សួរនិងប្រគេនសៀវភៅដូចវត្តឯទៀត ហើយចេញពីវត្តនោះ ត្រឡប់មក
តាមផ្លូវដែលត្រង់ទៅលើមាត់ជ្រូក ហើយបត់ចូលទៅវត្តក្រាំងចាយ ក្នុង
ខណ្ឌ ថាញ អី លោកអធិការវត្តនេះលោកជាឧបជ្ឈាយ៍ធំ កាលទៅដល់
បានឡើងទៅលើសាលាវត្ត ហើយបានសួរនិងប្រគេនសៀវភៅដូចវត្តឯ-
ទៀត រួចត្រឡប់មកវិញ មកឈប់នៅផ្លូវដែលនឹងចូលទៅវត្តស្វាយតាសំ
ក្នុងខណ្ឌជាមួយគ្នា ហើយបានឲ្យទៅនិមន្តលោកអធិការវត្តស្វាយតាសំ

មកជួបហើយបានសួរ និងប្រគេនសៀវភៅជូនវត្តឯទៀត រួចត្រឡប់ពីវត្តនោះបតមកឯ ទ្រី តុង វិញ ខ្ញុំក៏ចុះឈប់សម្រាកនៅ ទ្រី តុង ជាមួយនិងឈ្មោះ ដី ក្នុងយប់នោះ ចំណែកចាងហ្វាងព្រះរាជបណ្ណាល័យ ក៏អញ្ជើញត្រឡប់ទៅឯមាត់ជ្រូកវិញ ។

ថ្ងៃ ១ ខែហ្វេវរីយេ ឆ្នាំ ១៩២៨

វេលាម៉ោង៩ព្រឹក មានប្រជុំលោកសង្ឃច្រើនវត្ត និងឧបាសកឧបាសិកាជាច្រើន នៅទីសាលាវត្តស្វាយទង ។ ចាងហ្វាងព្រះរាជបណ្ណាល័យ បានអញ្ជើញពីមាត់ជ្រូកមកដល់ទ្រីតុងនៅវេលាម៉ោង៨ ព្រឹក ហើយបានហួសទៅ ឯវត្តភ្នំជាមួយនឹងអស់យើង វត្តនោះ នៅលើភ្នំ១ ចម្ងាយពីទ្រីតុងទៅប្រហែលជា២គីឡូម៉ែត្រ មានផ្លូវរថយន្តឡើងទៅលើភ្នំនោះបានដរាបដល់ទីវត្ត កាលដែលដល់ទៅវត្តនោះឃើញការងារដែលលោកក្នុងវត្តកំពុងតែចាត់ចែងធ្វើ មានចាក់ដីជាដើម វត្តនេះប្រសិនបើហើយការងារសព្វគ្រប់ទៅ នឹងបានទៅជាវត្តមានរបៀបរៀបរយល្អ ។ ចាងហ្វាងព្រះរាជបណ្ណាល័យ ទៅដល់វត្តភ្នំនោះក៏នៅមិនបានយូរឡើយ ប្រញាប់ត្រឡប់មក ទ្រី តុង វិញ លុះដល់ម៉ោង ៩ ព្រឹក លោក ម្ស. ដមីនិស្ត្រាទ័រ និងលោកចាងហ្វាងសាលាបង្រៀនអក្សរបារាំងនៅមាត់ជ្រូកក៏បានអញ្ជើញមកដល់ហើយជួបជុំនៅទីវត្តស្វាយទង ។ ក្នុងឱកាសដែលជួបជុំនោះចាងហ្វាងព្រះរាជបណ្ណាល័យ បានឲ្យខ្ញុំនិយាយពន្យល់ផល

លោកសង្ឃ និងឧបាសកឧបាសិកាទាំងអស់ អំពីកំណើតនៃព្រះពុទ្ធ-សាសនា និងអំពីការបង្កើតឲ្យមានសាលាបាលី និងព្រះរាជបណ្ណាល័យឯក្រុងភ្នំពេញ ដែលជាទីមានប្រយោជន៍ដល់ព្រះពុទ្ធសាសនា និងពន្យល់អំពីរាជការក្នុងដែនកូសាំងស៊ីន ត្រូវការចង់បង្កើតឲ្យមានសាលារៀនខាងបែកខ្មែរ នៅក្នុងស្រុកកូសាំងស៊ីន ខ្ញុំក៏បាននិយាយពន្យល់អស់ចំនួន ៣០ មីនុត ។ រួចកិច្ចក្នុងទីប្រជុំនេះហើយ លោកឡាជមីនិ-ស្ត្រាទ័រ និងលោកបាងហ្វាងសាលាបាកំង ក៏អញ្ជើញត្រឡប់ទៅឯមាត់ជ្រូកវិញ ។

ដល់ម៉ោង ១១ កន្លះព្រឹក ចេញពី ទ្រីតុង បំពោះទៅវត្តគិរីវង្ស ក្នុងស្រុកទិញបៀង ព្រោះវត្តនេះបាននិមន្តទុកអំពីថ្ងៃមុន ថាដល់ថ្ងៃ ១០ នេះ នឹងប្រជុំអស់សាសនិកជនមានចំនួនច្រើន ដោយចង់ស្តាប់រឿងធម៌អាថ៌ខាងព្រះពុទ្ធសាសនា កាលដែលទៅដល់វត្តនេះ ក៏បានឃើញលោកសង្ឃជាច្រើនអង្គ ព្រមទាំងឧបាសកឧបាសិកាជាច្រើន ចំនួនប្រហែលជាង ២០០ នាក់ មកពីស្រុកជិតឆ្ងាយមកប្រជុំនៅវត្តនេះ យើងខ្ញុំក៏បានទៅអធិប្បាយធម៌ឲ្យស្តាប់ចំនួនជាង១ម៉ោង ឃើញអ្នកខ្លះមានសេចក្តីពេញចិត្តនិងត្រេកអរច្រើន បាននិមន្តឲ្យអធិប្បាយតទៅទៀត ប៉ុន្តែឥតមានពេលច្រើននឹងអធិប្បាយឲ្យស្តាប់តទៅទៀត ព្រោះដល់ពេលនឹងហួសទៅហាទៀនឲ្យដល់ទៅក្នុងថ្ងៃ១១នេះ ទើបបញ្ឈប់សន្ទនាថាចប់ធម៌ ក្នុង